# គោលការណ៍ប្រជាធិបតេយ្យ ១៣ ចំណុច

(13 Principles of Democracy)

## ១.ការចូលរួមរបស់ពលរដ្ឋ(Citizen Participation)

*គោលការណ៍សំខាន់មួយក្នុងការគ្រប់គ្រង គឺ ការចូលរួមរបស់ពលរដ្ឋ ។ ការដែលពលរដ្ឋចូលរួមចំណែកក្នុងការគ្រប់គ្រង ចាត់ជាមុខបាបយ៉ាងសំខាន់ក្នុងរបបប្រជាធិបតេយ្យ ។*

*ពលរដ្ឋមិនត្រឹមតែមានសិទ្ធិសេរីភាពប៉ុណ្ណោះទេ ប៉ុន្តែត្រូវមានកាតព្វកិច្ចផងដែរ ការចូលរួមរបស់ពលរដ្ឋមានច្រើនរូបបែបដូចជា ការឈរឈ្មោះឲ្យអ្នកដទៃបោះឆ្នោតឲ្យ ការបោះឆ្នោតឲ្យអ្នកដទៃ, មានសិទ្ធិដឹងឮ, ពិភាក្សាបញ្ហានានា, ការចូលរួមកិច្ចប្រជុំសហគមឬកិច្ចប្រជុំពលរដ្ឋ,ការចូលជាសមាជិកនៃអង្គការឯកជនដោយស្ម័គ្រចិត្ត បង់ពន្ធដារ និង ធ្វើបាតុកម្ម ។ ការចូលរួមរបស់ពលរដ្ឋជួយកសាងរបបប្រជាធិបតេយ្យឲ្យប្រសើរឡើង ។*

## ២.សមភាព (Equality)

*សង្គមប្រជាធិបតេយ្យសង្កត់ធ្ងន់លើគោលការណ៍ថាប្រជាជនទាំងអស់សុទ្ធតែស្មើគ្នា*

***សមភាព*** *មានន័យថា បុគ្គលគ្រប់រូបមានតម្លៃស្មើគ្នា មានឱកាសស្មើគ្នា និងមិនត្រូវបានប្រកាន់រើសអើងដោយសារជ័រជាតិ សាសនា ក្រុមអម្បូរ ភេទ ឬ ទំនោរផ្លូវភេទទេ នៅក្នុងរបបប្រជាធិបតេយ្យ បុគ្គលនិងក្រុមនីមួយៗនៅរក្សាការពារសិទ្ធិសេរីភាពក្នុងការមានវប្បធម៌ផ្សេងៗគ្នា អត្តចរិយាភាសា និង ជំនឿបាន ។*



## ៣.អភ័យទានផ្នែកនយោបាយ (Political Tolerance)

សង្គមប្រជាធិបតេយ្យគឺជាសង្គមដែលមានអភ័យទានផ្នែកនយោបាយ ។ អភ័យទាននេះមានន័យថា ក្នុងរបបប្រជាធិបតេយ្យ សម្លេងភាគច្រើនកាន់កាប់អំណាច ឯសិទ្ធិរបស់សម្លេងភាគតិចត្រូវតែទទួលបានការការពារ ។ ប្រជាជនដែលមិនកាន់អំណាចត្រូវអនុញ្ញាតឲ្យរៀបចំអង្គការ និង សម្តែងមតិយោបល់បាន ។ ជួនកាល សម្លេងភាគតិចសំដៅដល់គណៈបក្សប្រឆាំង ពីព្រោះសម្លេងភាគតិចអាចមានគំនិតយោបល់ផ្សេងពីសម្លេងភាគច្រើន ។ ពលរដ្ឋម្នាក់ ៗ ក៏ត្រូវរៀនសូត្រឲ្យអភ័យទានដល់គ្នាទៅវិញទៅមកផងដែរ ។ សង្គមប្រជាធិបតេយ្យប្រកបដោយប្រជាជនដែលចេញមកពីវប្បធម៌ផ្សេងគ្នា ក្រុមជំរជាតិ ក្រុមសាសនា និង ក្រុមអម្បូរ ដែលមានទស្សនៈផ្សេងពីសម្លេងភាគច្រើនរបស់ប្រជានិករ ។ សង្គមប្រជាធិបតេយ្យស្តុកស្តម្ភដោយសារភាពចម្រុះ ។ ប្រសិនបើសម្លេងភាគច្រើនបដិសេធសិទ្ធិ និង បំផ្លាញការប្រឆាំងរបស់សម្លេងភាគតិច ក្នុងករណីនោះ ក៏ឈ្មោះថាបំផ្លាញប្រជាធិបតេយ្យដែរ ។

គោលបំណងរបស់ប្រជាធិបតេយ្យគឺត្រូវធ្វើការសម្រេចចិត្តឲ្យបានល្អបំផុតសម្រាប់សង្គម ដើម្បីសម្រេចគោលបំណងនេះ ត្រូវគោរពប្រជាជនគ្រប់ស្រទាប់វណ្ណៈ និងទស្សនៈយោបល់របស់ប្រជាជន បើពលរដ្ឋទាំងអស់ត្រូវបានអនុញ្ញាតឲ្យពិភាក្សា អភិប្រាយ និង សួរដេញដោលសេចក្តីសម្រេចចិត្តនោះបាន សេចក្តីសម្រេចចិត្តនោះក៏ទំនងជាត្រូវទទួលយកបានសូម្បីដោយសម្លេងភាគតិចដែលប្រឆាំងក៏បាន ។



## ៤.គណនេយ្យភាព (accountability)

នៅក្នុងរបបប្រជាធិបតេយ្យ មន្ត្រីដែលជាប់ឆ្នោតនិងមន្ត្រីដែលទទួលបានការតែងតាំងត្រូវមានទំនួលខុសត្រូវចំពោះប្រជាជន មន្ត្រីទាំងនោះត្រូវទទួលខុសត្រូវចំពោះសកម្មភាពរបស់ខ្លួន មន្ត្រីទាំងឡាយត្រូវតែធ្វើការសម្រេចចិត្តនិងបំពេញកាតព្វកិច្ចស្របទៅតាមឆន្ទៈនិងបំណងរបស់ប្រជាជន មិនមែនតាមឆន្ទៈនិងបំណងរបស់ខ្លួនឯងទេ ។

## ៥.តម្លាភាព (Transparency)

សម្រាប់រដ្ឋាភិបាលដែលទទួលខុសត្រូវ ប្រជាជនត្រូវតែបានដឹងឮនូវហេតុការណ៍ដែលកើតឡើងនៅក្នុងប្រទេស នេះចាត់ទុកបានថាជាតម្លាភាពនៅក្នុងការគ្រប់គ្រង ។ រដ្ឋាភិបាលដែលមានតម្លាភាពត្រូវប្រារព្ធធ្វើសមាជសាធារណៈទាំងអនុញ្ញាតឲ្យពលរដ្ឋចូលរួម ។ នៅក្នុងរបបប្រជាធិបតេយ្យ ប្រព័ន្ធផ្សព្វផ្សាយព័ត៌មាន និង ប្រជាជនអាចទទួលព័ត៌មានអំពីរឿងដែលរដ្ឋាភិបាលធ្វើការសម្រេចចិត្តអំពីអ្នកដែលធ្វើការសម្រេចចិត្ត និង អំពីហេតុផលដែលត្រូវសម្រេចចិត្តបាន ។

## ៦.ការបោះឆ្នោតដែលទៀងទាត់ សេរី និង យុត្តិធម៌ (Regular, Free and Fair Elections)

វិធីមួយដែលពលរដ្ឋរបស់ប្រទេសសម្តែងឆន្ទៈរបស់ខ្លួន គឺ ការទៅចូលរួមបោះឆ្នោតឲ្យបេក្ខជនដែលខ្លួនពេញចិត្តឲ្យទៅធ្វើជាអ្នកតំណាងរបស់ខ្លួននៅក្នុងការគ្រប់គ្រង, របបប្រជាធិបតេយ្យសង្កត់ធ្ងន់ថា មន្ត្រីដែលជាប់ឆ្នោតទាំងនេះត្រូវបានជ្រើសរើសនិងដកហូតពីមុខតំណែងដោយសន្តិវិធីក្នុងលក្ខណៈសេរីនិងយុត្តិធម៌ ។ ការបំភិតបំភ័យ, អំពើពុករលួយនិងការគំរាមគំហែងពលរដ្ឋក្នុងកំលុងការបោះឆ្នោត ឬ មុនការបោះឆ្នោត ឈ្មោះថា កំពុងប្រឆាំងនឹងគោល



ការណ៍របបប្រជាធិបតេយ្យ ។ នៅក្នុងរបបប្រជាធិបតេយ្យ ការបោះឆ្នោតត្រូវប្រារព្ធធ្វើឡើងយ៉ាងទៀងទាត់រាល់ច្រើនឆ្នាំ ( 5 ឆ្នាំ) ម្តង ។ ការចូលរួមនៅក្នុងការបោះឆ្នោតមិនផ្អែកទៅទ្រព្យរបស់ពលរដ្ឋទេ ។ សម្រាប់ការបោះឆ្នោតដោយសេរីនិងយុត្តិធម៌ដែលនឹងប្រារព្ធធ្វើឡើង ពលរដ្ឋដែលមានយុវភាពបំផុតត្រូវមានសិទ្ធិឈរឈ្មោះដើម្បីមុខតំណែងក្នុងការគ្រប់គ្រង លើសពីនោះទៀត មិនត្រូវឲ្យមានឧបសគ្គដែលនាំឲ្យមានការលំបាកដល់ពលរដ្ឋក្នុងការទៅចូលរួមបោះឆ្នោតទេ ។

## ៧.សេរីភាពផ្នែកសេដ្ឋកិច្ច (Economic Freedom)

ប្រជាជននៅក្នុងរបបប្រជាធិបតេយ្យត្រូវមានរូបបែបនៃសេរីភាពផ្នែកសេដ្ឋកិច្ចមួយចំនួន នេះមានន័យថា រដ្ឋាភិបាលអនុញ្ញាតឲ្យមានកម្មសិទ្ធិឯកជននៃទ្រព្យសម្បត្តិនិងពាណិជ្ជកម្មមួយចំនួន និងថា ប្រជាជនត្រូវអនុញ្ញាតឲ្យជ្រើសរើសការងារផ្ទាល់ខ្លួននិងសហជីពបាន ។ តួនាទីរបស់រដ្ឋាភិបាលដែលត្រូវបំពេញនៅក្នុងសេដ្ឋកិច្ច គឺ បើកឲ្យមានការពិភាក្សា ប៉ុន្តែសេដ្ឋកិច្ចដែលគេទទួលស្គាល់ជាទូទៅនៅក្នុងរបបប្រជាធិបតេយ្យ គឺ **ទីផ្សារសេរី** ហើយរដ្ឋមិនត្រូវក្តោបក្តាប់សេដ្ឋកិច្ចទាំងស្រុងទេ ។

មានអ្នកខ្លះសម្តែងហេតុផលថា រដ្ឋគប្បីបំពេញតួនាទីឲ្យបានម៉ឺងម៉ាត់នៅក្នុងប្រទេសដែលមានអសមភាពនៃទ្រព្យសម្បត្តិខ្លាំងក្លាដោយសារតែការរើសអើងក្នុងអតីតកាល ឬ ការបដិបត្តិដែលអយុត្តិធម៌ផ្សេង ៗ ។



## ៨.ការទប់ស្កាត់ការប្រើអំណាចខុសតួនាទី (Control of the Abuse of Power)

សង្គមប្រជាធិបតេយ្យព្យាយាមទប់ស្កាត់មន្ត្រីឬក្រុមមនុស្សដែលជាប់ឆ្នោតណាមួយមិនឲ្យប្រើអំណាចខុសតួនាទី ឬ ប្រើអំណាចមិនត្រឹមត្រូវ ។ ការប្រើអំណាចដែលមិនត្រឹមត្រូវយ៉ាងសាមញ្ញបំផុតមួយ គឺ **អំពើពុករលួយ** ។ អំពើពុករលួយកើតឡើងនៅពេលដែលមន្ត្រីរដ្ឋាភិបាលប្រើថវិកាជាតិដើម្បីផលប្រយោជន៍ផ្ទាល់ខ្លួន ឬ ប្រើអំណាចទៅក្នុងលក្ខណៈខុសច្បាប់ ។

មធ្យោបាយជាច្រើនត្រូវបានយកទៅប្រើនៅក្នុងប្រទេសផ្សេងៗ ដើម្បីទប់ស្កាត់មិនឲ្យមានការប្រើអំណាចមិនត្រឹមត្រូវទាំងនេះ ។ ជារឿយ ៗ ការគ្រប់គ្រងត្រូវរៀបចំគម្រោងដើម្បីដាក់កំហិតលើអំណាចនៃសាខាគ្រប់គ្រង គឺ ការដែលនឹងមានតុលាការឯករាជ្យ និង ភ្នាក់ងារមានអំណាចក្នុងការធ្វើសកម្មភាពទល់នឹងអំពើខុសច្បាប់ណាមួយ ត្រូវអនុញ្ញាតឲ្យមានការចូលរួម និង ការបោះឆ្នោតពីសម្នាក់ពលរដ្ឋ ហើយឲ្យត្រួតពិនិត្យមើលការប្រើអំណាចមិនត្រឹមត្រូវរបស់នគរបាល ។

## ៩.កម្រងសិទ្ធិពលរដ្ឋ (Bill of Rights )

ប្រទេសប្រជាធិបតេយ្យជាច្រើនសម្រេចចិត្តបង្កើតកម្រងសិទ្ធិពលរដ្ឋដើម្បីទប់ស្កាត់ប្រជាជនមិនឲ្យប្រើអំណាចមិនត្រឹមត្រូវ ។ **កម្រងសិទ្ធិពលរដ្ឋ** គឺជាតារាងសិទ្ធិ និង សេរីភាពដែលធានាដល់ប្រជាជនទាំងអស់នៅក្នុងប្រទេស ។

នៅពេលដែលកម្រងសិទ្ធិពលរដ្ឋក្លាយទៅជាផ្នែកនៃរដ្ឋធម្មនុញ្ញរបស់ប្រទេសហើយ តុលាការមានកណ្តាប់ដៃក្នុងការអនុវត្តលើសិទ្ធិទាំងនេះ ។ កម្រងសិទ្ធិពលរដ្ឋដាក់កំហិតលើអំណាចនៃការ គ្រប់គ្រងនិងក៏អាចដាក់កំណត់កាតព្វកិច្ចទៅលើឯកត្តជននិងអង្គការនានាផងដែរ ។



## ១០.ការទទួលយកលទ្ធផលនៃការបោះឆ្នោត (Accepting the Result of Elections)

*នៅក្នុងការបោះឆ្នោតបែបប្រជាធិបតេយ្យ តែងមានទាំងអ្នកឈ្នះនិងអ្នកចាញ់ ។ អ្នកចាញ់ក្នុងការបោះឆ្នោតច្រើនតែជឿជាក់យ៉ាងម៉ឺងម៉ាត់ថា គណៈបក្សឬបេក្ខជនរបស់ខ្លួនគឺជាអ្នកឆ្នើមបំផុត ហើយក៏បដិសេធមិនទទួលយកលទ្ធផលនៃការបោះឆ្នោត ។ ទង្វើនេះ ឈ្មោះថា ប្រឆាំងនឹងគោលការណ៍ប្រជាធិបតេយ្យ ។*

*ផលវិបាកនៃការមិនទទួលយកលទ្ធផលនៃការបោះឆ្នោតអាចនាំឲ្យមានរដ្ឋាភិបាលដែលគ្មានប្រសិទ្ធិភាពនិងមិនអាចធ្វើការសម្រេចចិត្តណាៗបាន ហើយក៏អាចនាំឲ្យកើតមានអំពើហិង្សាដែល ប្រឆាំងនឹងរបបប្រជាធិបតេយ្យដែរ ។*

## ១១.សិទ្ធិមនុស្ស(Human Rights)

*របបប្រជាធិបតេយ្យទាំងពួងតែងប្រឹងប្រែងគោរពនិងការពារសិទ្ធិមនុស្សរបស់ពលរដ្ឋ ។*

***សិទ្ធិមនុស្ស*** *សំដៅដល់គុណតម្លៃរបស់មនុស្សដែលឆ្លុះបញ្ចាំងដល់ការគោរពជីវិតមនុស្ស និងសេចក្តីថ្លៃថ្នូររបស់មនុស្ស ។ របបប្រជាធិបតេយ្យសង្កត់ធ្ងន់លើគុណតម្លៃរបស់មនុស្សម្នាក់ ៗ ។*

*តួយ៉ាងនៃសិទ្ធិមនុស្ស ដូចជា សេរីភាពនៃការសម្តែងយោបល់, សេរីភាពនៃការសេពគប់រាប់រកគ្នា, សេរីភាពនៃការជួបជុំគ្នា, សិទ្ធិនៃសមភាព និង សិទ្ធិនៃការសិក្សា ។*



## ១២.របបពហុបក្ស (Multi-Party System)

*ដើម្បីមានរបបពហុបក្សមួយ គណៈបក្សនយោបាយច្រើនជាងមួយគណៈបក្សត្រូវតែចូលរួមនៅក្នុងការបោះឆ្នោត និង ដើរតួនាទីនៅក្នុងការគ្រប់គ្រង ។*

*របបពហុបក្សអនុញ្ញាតឲ្យមានគណៈបក្សប្រឆាំងដែលឈ្នះឆ្នោត ។ គណៈបក្សប្រឆាំងនេះជួយផ្តល់យោបល់ផ្សេងលើបញ្ហានានាដល់រដ្ឋាភិបាល ។ លើសពីនោះទៀតរបបពហុបក្សក៏ផ្តល់ដល់អ្នកបោះឆ្នោតឲ្យមានជម្រើសបេក្ខជន គណៈបក្ស និង គោលនយោបាយដើម្បីបោះឆ្នោតគាំទ្រផងដែរ ។ ជាប្រវត្តិសាស្រ្ត នៅពេលប្រទេសមួយមានតែគណៈបក្សមួយ, លទ្ធផល គឺ ក្លាយទៅជារបបផ្តាច់ការ ។*

## ១៣.នីតិរដ្ឋ(Rule of Law)

*នៅក្នុងរបបប្រជាធិបតេយ្យ គ្មានជនណានៅពីលើច្បាប់បានទេ ទោះជាស្តេច ឬ ប្រធានាធិបតីជាប់ឆ្នោតក៏ដោយ ។ នេះហៅថា **នីតិរដ្ឋ** ។ **នីតិរដ្ឋ** មានន័យថា ជនគ្រប់រូបត្រូវតែគោរពច្បាប់ ហើយតោងតែទទួលខុសត្រូវប្រសិនបើមានការរំលោភបំពានច្បាប់ ។ របបប្រជាធិបតេយ្យសង្កត់ធ្ងន់ថា ច្បាប់ត្រូវបានយកទៅអនុវត្តដោយស្មើមុខគ្នា ដោយយុត្តិធម៌ និង យ៉ាងស្មើដើមស្មើចុង ។ ជួនកាលសំដៅដល់ **នីតិវិធីសមស្រប** ក៏មាន ។*

“ពាលោ អបរិនាយកោ”

ជនពាលមិនគប្បីធ្វើជាអ្នកនយោបាយ ។ ពុទ្ធវចនៈ ។ 5/05/2011

---



